# ការរៀបចំសាកសព




ក្រុមបកប្រែ

ឡេះ វ៉ហ្យាលី

អាប់ឌុលកឌៀរ ហ៊ើរូន

អ៊ូស្មាន មូហាំម៉ាត់

អ្នកត្រួតពិនិត្យ

មូហាំម៉ាត់ ពិន យូសុះ

អះម៉ាត់ យ៉ាក់កូប

សេន អ៊ុម

## ក្រុមបកប្រែ

**ឡេះ វ៉ៃហ្វាលី**

និស្សិតបញ្ចប់ការសិក្សាបរិញ្ញាប័ត្រផ្នែកច្បាប់សាសនាឥស្លាមនៃសកលវិទ្យាល័យឥស្លាមម៉ាឌីណះ

**អាប់ឌុលកឌៀរ ហ៊ើរូន**

និស្សិតបញ្ចប់ការសិក្សាបរិញ្ញាប័ត្រផ្នែកច្បាប់សាសនាឥស្លាមនៃសកលវិទ្យាល័យឥស្លាមម៉ាឌីណះ

**អ៊ូស្មាន មូហាំមាត់**

និស្សិតបញ្ចប់ការសិក្សាបរិញ្ញាប័ត្រផ្នែកភាសាអារ៉ាប់នៃសកលវិទ្យាល័យឥស្លាមម៉ាឌីណះ

## អ្នកត្រួតពិនិត្យ

**មូហាំម៉ាត់ ពិនយូសុះ**

និស្សិតបញ្ចប់ការសិក្សាបរិញ្ញាប័ត្រផ្នែកឌាក់វ៉ាស់ នៃ សក ល វិទ្យាល័យអ៊ីស្លាមអ៊ីមាំមូហាំម៉ាត់ពិនសាអ៊ូតទីក្រុងរីយ៉ត

**អះមាត់យ៉ាក់កូប**(បានទទួលមរណភាព)

*និស្សិតបញ្ចប់ការសិក្សា បរិញ្ញាប័ត្រផ្នែកហាហ្វិស្សនៃសកល
វិទ្យាល័យអីស្វាមម៉ាឌីណះ*

**ផ្នែកអក្សរសាស្ត្រខ្មែរ**

**សេនអ៊ីម**

*និស្សិតបញ្ចប់ការសិក្សា បរិញ្ញាប័ត្រផ្នែកអក្សរសាស្ត្រខ្មែរ
នៃសកលវិទ្យាល័យភូមិន្ទ*

# អារម្ភកថា

اَلْحَمْدُ لِلّٰهِ الَّذِيْ سَهَّلَ لِعِبَادِهِ الْمُتَّقِيْنَ إِلَى مَرْضَاتِهِ سَبِيْلاً ، وَ أَوْضَحَ لَهُمْ طُرُقَ الْهِدَايَةِ وَجَعَلَ اتِّبَاعَ الرَّسُوْلَ عَلَيْهَا دَلِيْلاً وَاتَّخَذَ عَبِيْدًا لَهُ فَأَقَرُّوْا لَهُ بِالْعُبُوْدِيَّةِ وَلَمْ يَتَّخِذُوْا مِنْ دُوْنِهِ وَكِيْلاً ، أَمَّا بَعْدُ :

ដោយយល់ឃើញថាអ្នកកាន់សាសនាឥស្លាមនៅប្រទេសកម្ពុជាភាគច្រើនពុំទាន់បានយល់ច្បាស់អំពីរបៀបរៀបចំសាកសព ទើបយើងខ្ញុំទាំងអស់គ្នាជានិស្សិតដែលបញ្ចប់ការសិក្សានៃសកលវិទ្យាល័យឥស្លាមម៉ាឌីណះបានសហការគ្នាបកប្រែឯកសារទាក់ទងនឹងការរៀបចំសាកសពជាភាសាខ្មែរនេះឡើង។

សៀវភៅតូចនេះត្រូវបានបកប្រែចេញពីអត្ថបទអត្ថាធិប្បាយដែលបានរៀបរៀងឡើងដោយពោងពុម្ពឌើរុលដើរ៉ាបជាភាសាអារ៉ាប់ ។

សូមបញ្ជាក់ថា យើងខ្ញុំបានធ្វើការកែរសំរួលពាក្យពេចន៍ និងឃ្លាមួយចំនួន ដើម្បីងាយយល់និងស្រួលស្តាប់ ព្រមទាំងបានដាក់រូបភាពនៅតាមចំនុចនីមួយៗសំរួលបន្ថែមដល់ការយល់នៃអត្ថ

បទដោយមានភស្តុតាងជាបាទេសឬភស្តុតាផ្សេងៗបញ្ជាក់។

យើងខ្ញុំទាំងអស់គ្នាមានសេចក្តីសង្ឃឹមនិងជឿជាក់ថាសមិទ្ធិផលតូចស្តើងនេះពិតជានឹងក្លាយជាត្រីវិស័យសំរាប់ចង្អុរបង្ហាញអស់លោកអ្នកអាននិងសាសនិកឥស្លាមទាំងអស់សំរាប់អនុវត្តអោយបានត្រឹមត្រូវតាមមាគ៌ាគម្ពីរអាល់គួរអាននិងស៊ុណ្ណះតាមកិច្ចប្រណិប័តន៍របស់ខ្លួន។ លើសពីនេះវាជាប្រធានបទមួយក្នុងការពិចារណាអំពីការប្រតិបត្តិនៃជំនឿសាសនាឥស្លានផងដែរ។

ទីបញ្ចប់យើងខ្ញុំទាំងអស់គ្នារង់ចាំជានិច្ចនូវការរិះគន់ស្ថាបនាពីសំណាក់មិត្តអ្នកអាននិងសាសនិកឥស្លាមទាំងអស់អំពីគ្រប់មជ្ឈដ្ឋានក្នុងន័យកែរលំអរដើម្បីរំលេចចេញនូវសុក្រិតភាពបន្ថែមទៀតនៃការបកប្រែរបស់យើងខ្ញុំនាពេលក្រោយ។

(សូមអរគុណ)

ចំពោះអ្នកមូស្លីមទាំងឡាយគប្បីត្រៀមខ្លួនសំរាប់សេចក្តីស្លាប់មកដល់ដោយខិតខំប្រណិប័តអំពើល្អនិងចៀសវាងអំពីប្រការអាក្រក់ហើយគប្បីគិតជាប់ក្នុងអារម្មណ៍ជានិច្ចពីសេចក្តីស្លាប់។ ណាពី(ស-ល-)មានប្រសាសន៍ថា:

( أَكْثِرُوا مِنْ ذِكْرِ هَادِمِ اللَّذَّاتِ ) رواه الترمذي وصححه الألباني في الإرواء ( 682 ).

មានន័យថា:(ចូរពួកអ្នករំលឹកអោយបានច្រើនពីការផ្តាច់រសជាតិឆ្ងាញ់នៅលោកិយ(សេចក្តីស្លាប់)។

- នៅពេលមានអ្នកមូស្លីមណាម្នាក់បានស្លាប់ចាំបាច់សំរាប់អ្នកនៅទីនោះបំពេញនូវកាតព្វកិច្ចជាច្រើនដូចជា៖

១-ត្រូវបិទភ្នែកទាំងពីររបស់សពពីព្រោះណាពី(ស-ល-វ)បានបិទភ្នែករបស់អាពូសាឡាម៉ាស់(រ៉-ឧ-ហ)រួចមានប្រសាសន៍ថា:

(إِنَّ الرُّوْحَ إِذَا قُبِضَ تَبِعَهُ الْبَصَرُ) رواه مسلم

មានន័យថា:(ប្រាកដណាស់ព្រលឹងនៅពេលគេដកយកភ្នែកនឹងតាមមើលវា)។

២- ត្រូវពត់សន្ទាក់ដៃជើងរបស់សព ដើម្បីកុំអោយរឹងនិង ដាក់វត្ថុអ្វីមួយនៅលើពោះសាកសពដើម្បីកុំអោយហើម។

៣-ត្រូវគ្របសពដោយប្រើក្រណាត់ដែលអាចគ្របជិត ពេញខ្លួនសាកសព ព្រោះយោងតាមសំដីអាអ៊ីសះ(រ-ឌ- ហ៊ី)បាននិយាយថា :

(أَنَّ رَسُولَ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ حِينَ تُوَفِّيَ سُجِّيَ بِبُرْدِ حَبْرَةٍ) متفق عليه

មានន័យថា: ប្រាកដណាស់រ៉ស៊ូលុលឡោះ(ស-ល-វ)នៅ ពេលលោកទទួលមរណភាពត្រូវបានគេគ្របដោយណា ត់ហាប់រ៉ស់(ឈ្មោះក្រណាត់ឆ្នូតម៉្យាងសំរាប់គ្របសាក សព)។

៤-ត្រូវប្រញាប់ប្រញាល់រៀបចំសាកសពសឡាតនិងយក សពទៅបញ្ចុះដោយយោងតាមប្រសាសន៍ណាពី (ស-ល-វ )ថា៖

قال : (أَسْرِعُوا بِالْجِنَازَةِ )متفق عليه

មានន័យថា:(សូមអ្នកទាំងអស់គ្នាប្រញាប់ប្រញាល់ចំ

ពោះសាកសព)។

៥-ត្រូវបញ្ចុះសាកសពនៅក្នុងស្រុកដែលបុគ្គលនោះបានស្លាប់ ពីព្រោះណាពី(ស-ល-វ)នៅថ្ងៃសង្គ្រាមអ៊ូហ៊ុដ(أُحُد) លោកបានបញ្ជាអោយគេបញ្ចុះអ្នកដែលបានស្លាប់ទាំងអស់នៅកន្លែងស្លាប់របស់ពួកគេហើយពួកគេ(ពួកអ្នកស្លាប់)មិនត្រូវបានគេផ្លាស់ទីឡើយ។

# ការងូតទឹកអោយសាកសព

ការងូតទឹក ការរុំ(កាហ្វាន់)សឡាតនិងការបញ្ចុះសពជាហ្វារទូគីហ្វ៊ីយ៉ះ(فَرْضٌ كِفَايَةٌ)។ ដូច្នេះបើមានអ្នកមូស្លីមមួយចំនួនបានធ្វើហើយ គឺអ្នកមូស្លីមផ្សេងដែលមិនបានធ្វើត្រូវរួចទោស។

- អ្នកដែលសក្តិសមត្រូវងូតទឹកអោយសាកសពមុនគេ គឺអ្នកដែលសាកសពបានផ្តាំអោយងូតទឹកអោយគាត់(ពេលគាត់ស្លាប់)។

បញ្ជាក់បន្ថែមៈ

ប្រសិនបើសាកសពបានផ្តាំចំទៅលើអ្នកដែលច្បាប់មិនអនុញ្ញាតអោយងូតទឹកអោយគឺពុំអាចយកមកអនុវត្តបានឡើយ។

-បន្ទាប់មកឪពុករបស់សាកសព ព្រោះថាគាត់ជាអ្នកដែលមានការសណ្តោសប្រណីនិងការយល់ដឹងច្រើនជាងកូនបន្ទាប់មកសាច់ញាតិដែលជិតៗ។

-សាកសពស្ត្រីដែលត្រូវងូតទឹកអោយគាត់គឺតាមបណ្តាំរបស់គាត់(ស្ត្រីដូចគ្នា)។បន្ទាប់មកម្តាយរបស់គាត់ បន្ទាប់មកទៀតកូនស្រីរបស់គាត់និងសាច់ញាតិដែលជិតៗ(ស្ត្រីដូចគ្នា)។

-ចំពោះប្តីអាចងូតទឹកអោយសពប្រពន្ធបានដោយយោងតាមប្រសាសន៍របស់រ៉សូលុលឡោះ(ស-ល-វ)ទៅកាន់អាអ៊ីសាស់ថា៖

(مَا ضَرَّكِ لَوْ مِتِّ قَبْلِي فَغَسَّلْتُكِ ) حديث صحيح رواه أحمد .

មានន័យថា: វាពុំមានបញ្ហាអ្វីចំពោះអ្នកទេ ប្រសិនបើអ្នកស្លាប់មុនខ្ញុំ ខ្ញុំនឹងងូតទឹកអោយអ្នក។ ហើយប្រពន្ធក៏អាចងូតទឹកអោយសពប្តីរបស់គាត់បានដែរ ព្រោះអាពូពើកើរ(أبو بكر) បានផ្តាំអោយប្រពន្ធរបស់គាត់ងូតទឹកអោយគាត់[1]។

- ចំពោះបុរសនិងស្ត្រីអាចងូតទឹកអោយអ្នកដែលមានអាយុតិចជាង៧ឆ្នាំ បើទោះជាសាកសពនោះប្រុសឬស្រីក៏ដោយ ពីព្រោះថាកេរ្តិ៍ខ្មាស់(عَوْرَة)របស់ពួកគេមិនទាន់ត្រូវបានគេរឹតបន្តឹងឡើយ។

- នៅពេលបុរសស្លាប់ក្នុងចំណោមស្ត្រី ឬស្ត្រីស្លាប់ក្នុងចំណោមបុរស ច្បាប់ពុំអនុញ្ញាតិអោយងូតទឹកអោយសាកសពនោះទេ។ ផ្ទុយទៅវិញគឺគេត្រូវតាយាំមុំអោយសាកសពនោះ។

[1] មានបញ្ជាក់នៅ(أخرجه عبد الرزاق في المصنف رقم 6117)។

# របៀបគោយហុំម៉ុ

ដោយបុគ្គលណាម្នាក់ក្នុងចំនោមអ្នកដែលនៅទីនោះប្រត់បាតដៃទាំងពីររបស់គាត់ទៅលើដី បន្ទាប់មកយកបាតដៃទាំងពីរនោះជូតទៅលើមុខនិងប្រអប់ដៃទាំងពីររបស់សាកសពប្រសិនបើជូតរហូតដល់កែងដៃក៏បានដែរ

-ការងូតទឹក និងការបញ្ចុះសពពីសំណាក់អ្នកមូស្លីមអោយអ្នកកាហ្វៀរត្រូវបានច្បាប់ហាមឃាត់ ព្រោះអល់ឡោះជាម្ចាស់បានមានបន្ទូលថា :

(وَلَا تُصَلِّ عَلَىٰ أَحَدٍ مِّنْهُم مَّاتَ أَبَدًا) سورة التوبة 84

មានន័យថា៖ (ឱមូហាំម៉ាត់!អ្នកកុំសឡាតអោយនរណាម្នាក់អោយសោះក្នុងចំណោមពួកពុតត្បុតនៅពេលស្លាប់)។ ដូចនេះប្រសិនបើ សឡាតអោយពួកនោះត្រូវបានហាមឃាត់ ហើយសឡាតវាជាប្រការធំបំផុតនោះ ពោលគឺប្រការដទៃទៀតក៏ត្រូវបានគេហាមឃាត់ដែរ។

ជាការស៊ីណាត់នៅពេលងូតទឹកអោយសពត្រូវគ្របកេរ្តិ៍

ខ្មាស់(عورة)របស់សាកសព បន្ទាប់មកដោះសំលៀកបំពាក់សាកសពចេញនិងបាំងសាកសពអំពីការមើលឃើញរបស់មនុស្ស ពីព្រោះសាកសពជួនកាលអាចស្ថិតនៅក្នុងលក្ខណៈដែលមិនគួរមើល (មើលរូបទី1)។




បន្ទាប់មកលើកផ្នែកក្បាលរបស់សាកសពឡើងអោយបានជិតស្មើនឹងលក្ខណៈអង្គុយនិងសង្កត់ពោះរបស់សាកសពដោយថ្នមៗដើម្បីបញ្ចេញនូវលាមក ទឹកនោមឬអ្វីផ្សេងៗពីសាកសព នៅពេលនោះត្រូវចាក់ទឹកអោយបានច្រើនដើម្បីបំបាត់នូវអ្វីដែលចេញពីខ្លួនសាកសព(រូបទី2)។



- បន្ទាប់មកអ្នកងូតទឹកអោយសាកសពត្រូវរុំក្រណាត់នឹងដៃរបស់គាត់ឬពាក់ស្រោមដៃដើម្បីសំអាតសាកសព(ពោលគឺសំអាតផ្លូវបន្ទោរបង់ទាំងពីរផ្ទាល់ដៃដោយមិនមើលកេរ្តិ៍ខ្មាស់របស់សាកសពឡើយ នេះបើសពមានអាយុ7ឆ្នាំឡើងទៅ) (រូបទី3)។




បន្ទាប់មកទៀតអ្នកងូតទឹកអោយសាកសពត្រូវសូត្រ (بِسْمِ اللهِ)និងយកវូឌុ(اَلْوُضُوْءُ)អោយសាកសពដូចវូឌុសឡាតដោយរ៉សូលលុ់ឡោះ(ស-ល-វ)បានមានប្រសាសន៍ទៅកាន់ពួកស្ត្រីដែលងូតទឹកអោយកូនស្រីរបស់លោកឈ្មោះហៃរូណាប់(زَيْنَبُ)ថា: (متفق عليه) اِبْدَأْنَ بِمَيَامِنِهَا وَمَوَاضِعَ الْوُضُوْءِ مِنْهَا មានន័យថា:(សូមអ្នកទាំងអស់គ្នាចាប់ផ្តើមផ្នែកខាងស្តាំនិងកន្លែងវូឌុពីវា)។

ប៉ុន្តែគេមិនត្រូវបញ្ចូលទឹកក្នុងច្រមុះឬមាត់សាកសពទេ ផ្ទុយទៅវិញអ្នកងូតទឹកអោយសាកសពត្រូវបញ្ចូលម្រាមដៃទាំងពីររបស់គាត់ដែលរុំដោយក្រណាត់សើមចូលទៅក្នុងបបូរមាត់របស់សាកសពហើយដុសធ្មេញនិងលូកក្នុងរន្ធច្រមុះទាំងពីររបស់សាកសពដើម្បីសំអាត។ បន្ទាប់មកជាការល្អគេត្រូវស្រោចក្បាលនិងពុកចង្ការបស់សាកសពដោយទឹកស្លឹកពុទ្រា(រូបទី4និងទី5)។







ហើយទឹកដែលនៅសល់គឺស្រោចនៅលើខ្លួន។ បន្ទាប់មកលាងចំហៀងស្តាំផ្នែកខាងមុខរបស់សព(រូបទី6)



និងផ្នែកខាងក្រោយ(រូបទី7 )។




បន្ទាប់មកត្រូវធ្វើដូចគ្នានៅចំហៀងឆ្វេងដោយសំអាងលើហាហ្ទិស្សដែលពោលកន្លងមក (اِبْدَأْنَ بِمَيَامِنِهَا)។ បន្ទាប់មកធ្វើដូចនេះជាលើកទី2និងលើកទី3 ព្រោះរ៉ស៊ូលុលឡោះ(ស-ល-វ)បានមានប្រសាសន៍នៅក្នុងហាទេសកន្លងមកថា៖ اِغْسِلْنَهَا ثَلاثًا មានន័យថា: សូមពួកអ្នកងូតទឹកអោយនាងបីដង។

នៅរាល់ៗលើកអ្នកងូតទឹកអោយសាកសពត្រូវបង្អូសដៃរបស់គាត់មកលើពោះរបស់សាកសពបើសិនជាមានចេញអ្វីពីសាកសពត្រូវសំអាតវា។

-សំរាប់អ្នកងូតទឹកអោយសាកសពអាចបន្ថែមការងូតទឹកលើសាកសពលើសពីបីដងបានទោះបីជាលើសពី7ដងក៏

ដោយនេះប្រសិនជាមានតំរូវការ។

-ជាការស៊ូណាត់ត្រូវលាយកាហ្វូរ(كَافُوْر)ក្នុងការងូតទឹក អោយសាកសពជាលើកចុងក្រោយរ៉ស៊ូលុលឡោះ(ស-ល-វ) មានប្រសាសន៍នៅក្នុងហាទេសកន្ទងមកថា :

(اِجْعَلْنَ فِي الْغَسْلَةِ الأَخِيْرَةِ كَافُوْرًا)

មានន័យថា:សូមពួកអ្នកទាំងអស់គ្នាលាយកាហ្វូរក្នុងការងូតទឹកចុងក្រោយ។

- កាហ្វូរជាគ្រឿងក្រអូបម៉្យាងត្រជាក់ក្លិនរបស់វាអាចបណ្តេញសត្វល្អិតបាន។(រូបទី8)



- ជាការល្អត្រូវផ្ងូតទឹកអោយសាកសពដោយទឹកត្រជាក់ លើកលែងតែអ្នកផ្ងូតទឹកអោយសាកសពត្រូវការទឹកក្តៅ ដោយសារមានប្រឡាក់ច្រើននៅលើខ្លួនរបស់សាកសព ។ ចំពោះអ្នកផ្ងូតទឹកអោយសាកសពអាចប្រើប្រាស់សាប៊ូ ដើម្បីការប្រលាក់តែមិនត្រូវដុសខ្លាំងពេកទេចៀសវាងការលាត់ស្បែករបស់សាកសពនិងអាចសំអាតធ្មេញរបស់សាកសពដោយប្រើប្រាសដុសធ្មេញបាន។

- ជាការល្អគប្បីតម្រឹមពុកមាត់ និងកាត់ក្រចកដៃរបស់សាកសពប្រសិនបើវែងលើសពីធម្មតា ចំនែកឯរោមឃៀកនិងរោមកេរ្តិ៍ខ្មាស់មិនបាច់កាត់ទេ។

- មិនគប្បីសិតសក់អោយសពទេ ព្រោះវានាំអោយដាច់ជ្រុះ។ ចំណែកឯសពស្ត្រីវិញ គប្បីក្រងសក់អោយនាងជាបីកំរងនិងទំលាក់ដាក់ពីក្រោយខ្នងរបស់នាង។

- ជាការល្អគេត្រូវជូតសាកសពបន្ទាប់ពីផ្ងូតទឹករួច។

- ប្រសិនបើមានចេញអ្វីមួយមិនល្អពីសាកសព (នោម លាមកឬឈាម )បន្ទាប់ពីការងូតទឹករហូត7ដងរួច ពេល នោះគេត្រូវទ្រាប់សំឡីត្រង់ប្រដាប់ភេទ រួចលាងកន្លែង ដែលប្រលាក់ណាជីសនោះ បន្ទាប់មកត្រូវយកវូឌុអោយ សព។ តែបើសិនជានៅតែមានចេញមកទៀតបន្ទាប់ពី បានវុំរួចនោះ គឺមិនត្រូវត្រឡប់មកងូតទឹកអោយសាក សពម្តងទៀតឡើយ ព្រោះវានាំអោយមានការលំបាកជា ខ្លាំង។

- ពេលណាអ្នកកាន់តំណមហាជ្ជ ឬអំរ៉ស់បានស្លាប់គឺត្រូវ ងូតទឹកអោយនិងស្រោចទឹកពុទ្រាដូចបានរៀបរាប់កន្លង មក ប៉ុន្តែគេមិនត្រូវលាបគ្រឿងក្រអូបនិងគ្របក្បាលរប ស់សាកសពនោះទេ បើសិនជាសពបុរស ដោយរ៉សូលុ លឡោះ(ស-ល-វ )បានមានប្រសាសន៍ (ក្នុងរឿងបុរស ម្នាក់ដែលបានស្លាប់ពេលដែលគាត់កំពុងកាន់តំណម ហាជ្ជ )ថា : لا تحنطوه មានន័យថា:សូមអ្នកទាំងអស់គ្នាកុំ

លាបគ្រឿងក្រអូបអោយគាត់។ លោកក៏មានប្រសាសន៍ទៀតថា៖ (لاَ تُخَمِّرُوْا رَأْسَهُ فَإِنَّهُ يُبْعَثُ يَوْمُ الْقِيَامَةِ مُلَبِّياً ) متفق عليه

មានន័យថា: សូមអ្នកទាំងអស់គ្នាកុំគ្របក្បាលរបស់គាត់ ព្រោះគាត់នឹងត្រូវគេពង្រស់ឡើងវិញនៅថ្ងៃបរលោកដោយសូត្រតាល់ប៊ីយ៉ាស់(تَلْبِيَة)។

- អ្នកដែលស្លាប់សែតក្នុងសង្គ្រាម(ដើម្បីឥស្លាម)មិនចាំបាច់ងូតទឹកអោយទេ ពីព្រោះរ៉ស៊ូលុលឡោះ(ស-ល-វ) (أَمَرَ بِقَتْلَى أُحُدٍ أَنْ يُدْفَنُوْا فِيْ ثِيَابِهِمْ وَأَلاَّ يُغَسَّلُوْا ) رواه البخاري

បានបញ្ជាអោយគេបញ្ចុះសពអ្នកដែលស្លាប់នៅអ៊ូហ៊ុដទាំងសំលៀកបំពាក់ពួកគេ ព្រមទាំងហាមងូតទឹកអោយពួកគេទៀតផង។

ពោលគឺបញ្ចុះសាកសពអ្នកស្លាប់សែតក្នុងសង្គ្រាមទាំងសំលៀកបំពាក់របស់ពួកគេដែលជាប់នឹងខ្លួននៅពេលដែលស្លាប់ បន្ទាប់ពីដោះអាវុធ និងសម្ភារៈចេញពីខ្លួនរបស់សាកសពហើយគេមិនចាំបាច់សម្អាតអោយទេ

ពីព្រោះរ៉សូលុលឡោះ(ស-ល-វ )លោកពុំបានសឡាត អោយអ្នកដែលស្លាប់សែតក្នុងសង្គ្រាមអ៊ូហ៊ុដឡើយ[1]។

- រីឯកូនរលូត(ទារក)នៅពេលមានអាយុ៤ខែឡើងគេត្រូវ ងូតទឹក សឡាតនិងដាក់ឈ្មោះអោយវា រ៉សូលុលឡោះ (ស-ល-វ )បានមានប្រសាសន៍ថា៖

(إِنَّ أَحَدَكُمْ يَكُوْنُ فِيْ بَطْنِ أُمِّهِ 40 يَوْماً نُطْفَةً ، ثُمَّ يَكُوْنُ عَلَقَةً مَثْلَ ذَلِكَ ، ثُمَّ يَكُوْنُ مُضْغَةً مِثْلَ ذَلِكَ ، ثُمَّ يُرْسَلُ لَهُ الْمَلَكُ فَيُنْفِخُ فِيْهِ الرُّوْحَ ) رواه مسلم

មានន័យថា:(ប្រាជកណាស់ម្នាក់ៗក្នុងចំណោមអ្នកទាំងអស់គ្នាស្ថិតក្នុងផ្ទៃម្ដាយរបស់ខ្លួនរយ:ពេល40ថ្ងៃដំបូងជាលក្ខណ:ទឹកកាម និង40ថ្ងៃបន្ទាប់ជាលក្ខណ:ដុំឈាម ហើយ40ថ្ងៃក្រោយមកទៀតក្លាយជារូបរាងទារក បន្ទាប់មកគេ(អល់ឡោះ)នឹងបញ្ជូនម៉ាឡាអ៊ីកាត់ដើម្បីផ្ដល់ព្រលឹងអោយវា)។ ពោលគឺបន្ទាប់ពី4ខែ ។ ដោយឡែកកូនរលូតដែលអាយុមិនទាន់ដល់4ខែវាគ្រាន់

[1] មានបញ្ជាក់នៅក្នុងសៀវភៅសុក្រិតទាំងពីរ។

តែជាសាច់មួយដុំដូច្នេះគេអាចកប់នៅកន្លែងណាក៏បាន និងមិនចាំបាច់សឡាតនិងផ្ងូតទឹកអោយឡើយ។

- សាកសពមួយចំនួនដែលច្បាប់មិនតំរូវផ្ងូតទឹកអោយ ដោយសារមូលហេតុដូចជា៖ អត់ទឹក ឬសាកសពដែលមានសភាពរលេះរលួយ ឬសាកសពត្រូវភ្លើងឆេះ គឺគេត្រូវតាយុាំមុំអោយសពនោះពោលគឺបុគ្គលណាម្នាក់ក្នុងចំណោមអ្នកដែលនៅទីនោះសង្កត់បាតដៃទាំងពីររបស់គាត់ទៅលើដីបន្ទាប់មកយកបាតដៃទាំងពីរជូតទៅលើមុខនិងប្រអប់ដៃទាំងពីររបស់សពប៉ុន្តែប្រសិនបើជូតដល់កែងដៃក៏បានដែរ។

- ចំពោះអ្នកដែលផ្ងូតទឹកអោយសាកសពត្រូវលាក់បាំងចំពោះអ្វីដែលគាត់បានឃើញនៅលើរាងកាយរបស់សាកសព នេះប្រសិនបើអ្វីដែលខ្លួនបានឃើញនោះពុំមែនជារូបភាពល្អទេ ដូចជារូបភាពឡើងខ្មៅលើផ្ទៃមុខរបស់សាកសពឬស្នាមផ្សេងៗលើរាងកាយសាកសព យោង

តាមប្រសាសន៍រ៉សូលុលឡោះ(ស-ល-វ)ថា :

(مَنْ غَسَّلَ مُسْلِماً فَكَتَمَ عَلَيْهِ ، غَفَرَاللهُ لَهُ أَرْبَعِيْنَ مَرَّةٍ ) رواه الحاكم

មានន័យថា: បុគ្គលណាបានងូតទឹកអោយសាកសពមូស្លីមម្នាក់ហើយបានលាក់បាំងអ្វីៗដែលគាត់បានឃើញលើសាកសព អល់ឡោះនឹងលើកលែងទោសអោយគាត់សែសិបដង។

## ការរុំសាកសព(កាហ្វាន់)

-ការរុំសាកសពជាប្រការចាំបាច់ រីឯតំលៃក្រណាត់រុំត្រូវយកពីទ្រព្យសម្បត្តិរបស់សាកសពដោយរ៉សូលុលឡោះ (ស-ល-វ ) បានមានប្រសាសន៍ក្នុងរឿងបុរសម្នាក់ដែលបានស្លាប់ក្នុងពេលកាន់តំណមហាជ្ជីថា៖ كَفِّنُوْهُ فِيْ ثَوْبَيْهِ មានន័យថា: (សូមអ្នកទាំងអស់គ្នារុំគាត់ក្នុងសំលៀកបំពាក់ទាំងពីររបស់គាត់)។

គេត្រូវចំណាយក្នុងការរុំសាកសពមុនការសងបំណុលបំពេញបណ្តាំនិងការចែកមរតក។

- បើសិនជាសាកសពនោះពុំមានថវិកាសំរាប់ទិញក្រណាត់រុំទេនោះ ចាំបាច់ចំពោះអ្នកមានភារកិច្ចផ្គត់ផ្គង់ដូចជាឪពុក ជីតា កូនឬចៅ ហើយបើសិនអ្នកទាំងអស់នោះគ្មានលទ្ធភាពទៀតចាំបាច់តំរូវទៅលើទ្រព្យសម្បត្តិរួមរបស់អ្នកមូស្លីម ហើយបើសម្បត្តិរួមអ្នកមូស្លីមពុំមានទៀតគឺចាំបាច់លើអ្នកធូរធារណាម្នាក់នៅក្នុងស្រុកនោះ។

- ជាប្រការចាំបាច់ក្នុងការរុំសាកសពគឺក្រណាត់មួយផ្ទាំងដែលអាចគ្របជិតរាងកាយ។

- ជាការល្អគេត្រូវរុំសាកសពបុរសដោយក្រណាត់បីជាន់ពណ៌ស ពីព្រោះរ៉សូលុលឡោះ(ស-ល-វ )ត្រូវបានគេរុំលោកពីក្រណាត់បីផ្ទាំងពណ៌ស[1] ដែលត្រូវគេអប់ដោយគ្រឿងក្រអូប បន្ទាប់មកគេក្រាលក្រណាត់លើគ្នាហើយគេដាក់ហានូត الحَنُوْط (វាជាគ្រឿងក្រអូបម៉្យាងសំរាប់ប្រើដាក់សាកសព)នៅចន្លោះក្រណាត់រុំជាន់ទីមួយ(រូបទី9)

[1] មានបញ្ជាក់នៅក្នុងសៀវភៅសុក្រិតទាំងពីរ។




បន្ទាប់មកគេដាក់សាកសពដេកផ្ងារលើក្រណាត់រុំទាំងនោះ(រូបភាពទី10)។




ក្រោយមកទៀតគេដាក់សំឡីដោយលាបគ្រឿងក្រអូបនៅចន្លោះផ្លូវបន្ទោរបង់របស់សាកសពដើម្បីកុំអោយមានជះក្លិនមិនល្អចេញពីសាកសព។

-ជាការល្អគេត្រូវចងក្រណាត់មួយផ្ទាំងដែលមានសំឡីនៅខាងលើ(ដូចក្នុងរូបទី9)គ្របកេរ្តិ៍ខ្មាសរបស់សាកសពដោយ

រុំក្រណាត់នោះលើផ្លូវបន្ទោរបង់ទាំងពីររបស់សាកសព។ -ជាការប្រសើរគេត្រូវដាក់ហានូតក្នុងអវៈយវៈដែលមានរន្ធនៅផ្នែកលើផ្ទៃមុខសាកសពដូចជាភ្នែកទាំងពីរ រន្ធច្រមុះ បបូរមាត់ រន្ធត្រចៀកនិងកន្លែងស៊ូជូតរបស់សាកសព ហើយប្រសិនបើគេលាបគ្រឿងក្រអូបសព្វរាងកាយរបស់សពនោះក៏ពុំមានបញ្ហាអ្វីឡើយ ដោយសារមិត្តសំលាញ់របស់រ៉ស៊ូលុលឡោះចំនួនបានធ្វើដូច្នេះដែរ។ បន្ទាប់មកគេបត់ចុងក្រណាត់រុំទីមួយទៅលើផ្នែកខាងស្តាំរបស់សាកសព(មើលរូបទី11)



ហើយគេបត់ចុងម្ខាងទៀតទៅលើផ្នែកខាងឆ្វេងរបស់សាកសព(មើលរូបទី12)



រួចមកគេបត់ក្រណាត់ជាន់ទីពីរនិងជាន់ទីបីដូចជាន់ទីមួយដែរៗក្រោយមកគេទាញក្រណាត់ដែលគ្របកេរ្តិ៍ខ្មាស់របស់សាកសពចេញ(ដូចក្នុងរូបទី12)រួចហើយគេចង7ចំណាង(មើលរូបទី15)



ដើម្បីកុំអោយក្រណាត់ដែលបត់រួចហើយនោះរលាចេញវិញ(មើលរូបទី13)ៗ



បន្ទាប់មកទៀតគេបត់ចុងក្រណាត់ដែលនៅសល់មកលើក្បាលនិងជើងទាំងពីររបស់សាកសព(មើលរូបទី14)



ហើយគេនឹងស្រាយបន្ទូចំណងទាំងនោះវិញនៅពេល បញ្ចុះ ប្រសិនបើចំណងតិចជាង7ចំណងក៏ពុំមានបញ្ហាអ្វីដែរ ពីព្រោះថាគោលបំណងនៃការចងគឺដើម្បីអោយក្រណាត់រុំនោះនៅជាប់ល្អប៉ុណ្ណោះ។

- គេអាចរុំសាកសពក្នុងសំលៀកបំពាក់មួយសំរាប់ក៏បានដែរ ប៉ុន្តែជាការល្អ គឺការធ្វើដូចដែលបានរៀបរាប់ខាងដើម។

- សពស្ត្រីត្រូវបានគេរុំដោយក្រណាត់ប្រាំជាន់ គឺសំពត់មួយនៅផ្នែកខាងក្រោមរាងកាយ (ចាប់ពីផ្ចិតចុះក្រោម) កន្សែងគ្របក្បាលនិងអាវមួយ(ដូចអាវធម្មតាតែគ្មានថ្នេរចំហៀង) និងក្រណាត់រុំពីរជាន់ទៀតគ្របជិតរាងកាយរបស់សាកសព ។

## សឡាតអោយសាកសព

-សឡាតអោយសាកសពជាហ្វារទូគីហ្វាយ៉ាស់(فَرْضٌ كِفَايَةٌ) មានន័យថា:ប្រសិនបើបងប្អូនមូស្លីមយើងមួយចំនួនបាន

សឡាត នោះគឺគ្រប់គ្រាន់ហើយ។

-នៅក្នុងស៊ុណ្ណះតំរូវអោយអ៊ីមុាំឈរនៅត្រង់ក្បាលរបស់សាកសពប្រុស(មើលរូបទី16)។




ចំណែកសពស្រ្តីវិញអោយអ៊ីមាំឈរនៅចំកណ្តាលខ្លួន(មើលរូបទី17)




ដូចដែលរ៉ស៊ូលុលឡោះ(ស-ល-វ) បានធ្វើ[1]។

---

[1] មានបញ្ជាក់នៅក្នុងសៀវភៅអាពូដាវូត។

-នៅក្នុងស៊ិណ្ណះត្រូវអោយអ៊ីម៉ាំឈរនៅពីមុខម៉ាក់ម៉ុំ ប៉ុន្តែ បើម៉ាក់ម៉ុំគ្មានកន្លែងឈរក្រោយអ៊ីម៉ាំទេ គេអនុញ្ញាតអោយឈរខាងស្តាំនិងខាងឆ្វេងអ៊ីមាំបានៗ

## របៀបសឡាតអោយសាកសព

1- អ៊ីម៉ាំសូត្រតឹកហ្បៀរ(تكبير)4ដង ដោយបន្ទាប់ពីតឹកហ្បៀរទី1សូត្រ:

أعوذ بالله من الشيطان الرجيم بسم الله الرحمن الرحيم

រួចសូត្រស៊ូរ៉ស់អាល់ហ្វាទីហាស់(الفاتحة)ៗ

2-តឹកហ្បៀរលើកទីពីររួច ត្រូវសឡាវ៉ាតលើណាហ្គីដូចគេសូត្រក្នុងតាស់យ៉ិតតីសូត្រថា :

اللَّهُمَّ صَلِّ عَلَى مُحَمَّدٍ، وَعَلَى آلِ مُحَمَّدٍ، كَمَا صَلَّيْتَ عَلَى إِبْرَاهِيمَ، وَعَلَى آلِ إِبْرَاهِيمَ، إِنَّكَ حَمِيدٌ مَجِيدٌ، وَبَارِكْ عَلَى مُحَمَّدٍ، وَعَلَى آلِ مُحَمَّدٍ، كَمَا بَارَكْتَ عَلَى إِبْرَاهِيمَ، وَعَلَى آلِ إِبْرَاهِيمَ، فِي الْعَالَمِينَ إِنَّكَ حَمِيدٌ مَجِيدٌ

ប្រសិនបើសូត្រត្រឹមតែ(اللَّهُمَّ صَلِّ عَلَى مُحَمَّدٍ)ក៏បានដែរៗ

3-តឹកហ្បៀរលើកទីបីរួច ត្រូវសុំឌូអាអោយសពដោយសូត្រដូចខាងក្រោមនេះ:

( اللَّهُمَّ اغْفِرْ لَهُ ، وَارْحَمْهُ ، وَعَافِهِ ، وَاعْفُ عَنْهُ ، وَأَكْرِمْ نُزُلَهُ ، وَوَسِّعْ مُدْخَلَهُ وَاغْسِلْهُ بِالْمَاءِ وَالثَّلْجِ وَالْبَرَدِ ، وَنَقِّهِ مِنَ الْخَطَايَا، كَمَا نَقَّيْتَ الثَّوْبَ الأَبْيَضَ مِنَ الدَّنَسِ ، وَأَبْدِلْهُ دَاراً خَيْراً مِنْ دَارِهِ ، وَأَهْلاً خَيْراً مِنْ أَهْلِهِ، وَزَوْجاً خَيْراً مِنْ زَوْجِهِ ، وَأَدْخِلْهُ الْجَنَّةَ ، وَأَعِذْهُ مِنْ عَذَابِ الْقَبْرِ، وَمِنْ عَذَابِ النَّارِ )

-ចំណែកឯកូនរលូតវិញដែលមានអាយុចាប់ពី4ខែឡើងទៅ ត្រូវសុំឌូអាដោយការសុំប្រណីទោសនិងក្តីអាណិតស្រឡាញ់ពីអុលឡោះជាម្ចាស់អោយឪពុកម្តាយរបស់វាដូចរ៉ស៊ូលុលឡោះ(ស-ល-វ)បានមានប្រសាសន៍ថា :

(السِّقْطُ يُصَلَّى عَلَيْهِ وَ يُدْعَى لِوَالِدَيْهِ بِالْمَغْفِرَةِ وَالرَّحْمَةِ ) رواه أبوداود

មានន័យថា: ចំពោះការរលូត គេសឡាតអោយវានិងសុំឌូអាពីអល់ឡោះនូវការប្រណីទោសនិងផ្តល់ការអាណិតស្រលាញ់ដល់ឪពុកម្តាយរបស់វា។

➢ របៀបឌូអាអោយសាកសពជាក្មេងគឺ៖

اَللَّهُمَّ اجْعَلْهُ فَرَطاً وَذُخْراً لِوَالِدَيْهِ، وَشَفِيعاً مُجَاباً. اَللَّهُمَّ ثَقِّلْ بِهِ مَوَازِينَهُمَا، وَأَعْظِمْ بِهِ أُجُورَهُمَا. وَأَلْحِقْهُ بِصَالِحِ الْمُؤْمِنِينَ، وَاجْعَلْهُ فِي كَفَالَةِ إِبْرَاهِيمَ.

-តឹកហ្មៀរលើកទី4រួចនៅស្ងៀមបន្តិចទើបអោយសឡាម ដោយបែរទៅខាងស្តាំតែម្តងប៉ុណ្ណោះដូចដែលរ៉ស៊ូលុល ឡោះបានធ្វើ[1] និងក៏អាចអោយសឡាមលើកទីពីរទៅឆ្វេងក៏បានដែរ[2]។

- ជាប្រការស៊ូណាត់អោយអ្នកចូលរួមសឡាតលើកដៃទាំងពីរនៅរាល់ពេលតឹកហ្មៀរដូចដែលរ៉ស៊ូលុលបានធ្វើ[3]។

-ចំពោះអ្នកសឡាតដែលមកមិនទាន់តឹកហ្មៀរជាមួយអ៊ីម៉ាំគឺគាត់ត្រូវធ្វើតាមអ៊ីម៉ាំ។

***ឧទាហរណ៍៖*** បើគាត់មកទាន់អ៊ីម៉ាំត្រឹមតឹកហ្មៀរទី3 គឺតំរូវអោយគាត់សុំឌូអាពីអល់ឡោះអោយសាកសព។ បន្ទាប់ពីតឹកហ្មៀរលើកទី4(បន្ទាប់ពីអ៊ីម៉ាំអោយសឡាម គាត់ត្រូវតឹកហ្មៀរថែមទៀត រួចសូត្រហ្វាទីហាស់ បន្ទាប់

---

[1] មានបញ្ជាក់នៅក្នុងសៀវភៅអាល់ហាកឹម។

[2] សូមពិនិត្យមើលក្នុងសៀវភៅរៀបចំសពរបស់លោកអាល់បានី។

[3] បានបញ្ជាក់ដោយលោកដារ៉កត់នីក្នុងឯកសារផ្តល់ច្បាប់របស់លោក។

មកតឹកហ្លៀរម្ដងទៀត រួចសឡាវ៉ាតទៅលើណាហ្ពី(ស-ល-វ )ហើយអោយសឡាម នេះបើសិនជាអាចធ្វើបានមុនពេលគេលើកសពចេញ។ តែបើគាត់មិនអាចធ្វើបានទេគាត់ត្រូវអោយសឡាមជាមួយនឹងអ៊ីម៉ាំដោយមិនបាច់បន្តទៀតទេ។

- អ្នកដែលមកមិនទាន់សឡាតអោយសាកសពមានន័យថាសឡាតរួមបានកន្លងផុត គឺគាត់អាចសឡាតនៅក្បែរផ្នូរសាកសពបាន ពោលគឺគាត់ត្រូវឈរសំដៅទិសគីបឡាត់ ហើយផ្នូរនៅពីមុខគាត់(មើលរូបទី18)ដូចជាទង្វើររបស់រ៉ស៊ូលុលឡោះ(ស-ល-វ )[1]។




[1] មានបញ្ជាក់ក្នុងសៀវភៅសុគ្រិតទាំងពីរ។

- គេអាចសឡាតអោយសាកសពដែលនៅឆ្ងាយ (صَلاَةُ الْغَائِبِ) គឺសាកសពដែលស្លាប់នៅស្រុកផ្សេង នេះបើសិនគ្មាននរណាសឡាតអោយសាកសពនោះទេ។

- អ្នកមូស្លីមអាចសឡាតអោយសាកសពដែលសំលាប់ខ្លួនឯងបាននិងអាចសឡាតអោយសពដែលស្លាប់ដោយសាររបួនគេ។ ប៉ុន្តែជាការប្រសើរសំរាប់ថ្នាក់ដឹកនាំឬអ្នកមានចំនេះដឹងនៅក្នុងស្រុកនោះមិនត្រូវសឡាតអោយសាកសពប្រភេទនេះទេ ដើម្បីអោយអ្នកដទៃចៀសវាងប្រការអស់ទាំងនោះ។

-ច្បាប់អនុញ្ញាតអោយសឡាតសាកសពនៅក្នុងម៉ាស្ជិតបានដូចរ៉ស៊ូលុលឡោះ(ស-ល-វ)បានធ្វើ[1]។ ប៉ុន្តែតាមស៊ុណ្ណះគេត្រូវរៀបចំកន្លែងដោយឡែកក្រៅម៉ាស្ជិតចៀសវាងការប្រលាក់ ហើយជាល្អកន្លែងជិតផ្លូវរាងាយស្រួលសំរាប់មនុស្សក្នុងការសែងសព។

[1] មានបញ្ជាក់នៅក្នុងសៀវភៅសហេសមូស្លីម។

# ការសែងសាកសពនិងការបញ្ចុះសាកសព

-ជាការប្រសើរក្នុងការសែងសាកសពត្រូវធ្វើជាលក្ខណៈបួនជ្រុងនៅលើស្មាអ្នកសែង(មើលរូបទី19)។




-ក្នុងស៊ុណ្ណះអោយប្រញាប់ប្រញាល់ក្នុងការសែងសាកសព តែមិនត្រូវអោយកំរើកខ្លាំងពេកទេ ដូចរ៉ស៊ូលុលឡោះ(ស-ល-វ )បានមានប្រសាសន៍ថា: اَسْرَعُوْا بِالْجَنَازَةِ មានន័យថា: (ចូរពួកអ្នកប្រញាប់ប្រញាល់ចំពោះសាកសព )។

- ច្បាប់អនុញ្ញាតអោយអ្នកដើរជង្ហែរសព អាចដើរខាងមុខ ខាងក្រោយ ខាងស្តាំនិងខាងឆ្វេងសាកសពបាន។ កិច្ចការទាំងនេះសុទ្ធតែនក្នុងស៊ុណ្ណះរ៉ស៊ូលុលឡោះ(ស-

ល-វ)[1] ។

- ជាប្រការមិនគប្បីឡើយ ចំពោះអ្នកដង្ហែរសព អង្គុយមុនពេលដាក់សពលើដី ព្រោះនេះជាប្រការហាមឃាត់របស់ណាពី។

- ជាការមិនគប្បីក្នុងការបញ្ចុះសាកសពក្នុងបីវេលាដែលរ៉សូលុលឡោះ(ស-ល-វ )បានហាមឃាត់ក្នុងការបញ្ចុះសព។ ដោយយោងតាមប្រសាសន៍របស់រ៉សូលុលឡោះ (ស-ល-វ ) ដូចហាហ្ទិស្សដែលបាននាំមកដោយអ៊ុកហ្ពះកូនអាមៀរ(រ-ឌ-ហ)បានពោលថា :

( ثَلَاثُ سَاعَاتٍ كَانَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ يَنْهَانَا أَنْ نُصَلِّيَ فِيهِنَّ، أَوْ نَقْبُرَ فِيهِنَّ مَوْتَانَا: حِينَ تَطْلُعُ الشَّمْسُ بَازِغَةً حَتَّى تَرْتَفِعَ، وَحِينَ يَقُومُ قَائِمُ الظَّهِيرَةِ حَتَّى تَمِيلَ، وَحِينَ تَضَيَّفُ الشَّمْسُ لِلْغُرُوبِ حَتَّى تَغْرُبَ) رواه مسلم

[1] សូមពិនិត្យមើលក្នុងសៀវភៅរៀបចំសពរបស់លោកអាល់បានី។

បានច្បាប់នុញ្ញាតទៅតាមសភាពងាយស្រួលលើកលែង តែបីពេលខាងលើ។

-ស៊ូណាត់អោយគេគ្របផ្នូររបស់សាកសពស្ត្រីនៅពេល ដែលកំពុងបញ្ចុះដើម្បីជាការបិទបាំងដល់សពស្ត្រីគេទ។

-ស៊ូណាត់អោយបញ្ចុះសាកសពក្នុងផ្នូរដែលមានបុរស ជាអ្នករៀបចំ(ផ្នូរ)ពីរនាក់។ ក្រោយមកត្រូវបីសាកសព បញ្ចូលតាមទិសបណ្តោយផ្នូរ(មើលរូបទី20)




ប្រសិនបើមានផលវិបាកគួរតែបញ្ចុះតាមទិសគីបឡាត់

( មើលរូបទី21)។



មានន័យថា:រ៉ស៊ូលុលឡោះ(ស-ល-វ)បានហាមឃើងខ្ញុំ មិនអោយសឡ្បាតនិងបញ្ចុះសាកសពក្នុងបីវេលាដូចខាងក្រោមនេះគឺ:

១- នៅពេលដែលព្រះអាទិត្យកំពុងរះឡើងលុះត្រារះឡើងផុត។

២-ពេលដែលព្រះអាទិត្យឡើងត្រង់លុះត្រាតែព្រះអាទិត្យជ្រេរបន្តិច។

៣-ពេលដែលព្រះអាទិត្យកំពុងលិចលុះត្រាតែលិចផុត។

-ចំពោះការហាមឃាត់បញ្ចុះសពនៅពេលព្រះអាទិត្យឡើងមានន័យថាចាប់តាំងពីមុនពេលថ្ងៃត្រង់បន្តិចរហូតដល់ថ្ងៃត្រង់។

- ចំពោះការហាមឃាត់បញ្ចុះសពនៅពេលព្រះអាទិត្យកំពុងលិចមានន័យថាចាប់តាំងពីថ្ងៃកំពុងលិចរហូតដល់លិចផុត ។

- ការបញ្ចុះសាកសពនៅពេលយប់ក្តីនៅពេលថ្ងៃក្តីត្រូវ

-ការជីករូងបញ្ចិតចូលទិសគីបឡាត់(លៀងល្ហាត់)ប្រសើរជាងការជីករូងត្រង់ចុះក្រោម ព្រោះរ៉សូលុលឡោះ(ស-ល-វ)បានមានប្រសាសន៍ថា:

(اَلْلَحْدُ لَنَا وَالشَّقُّ لِغَيْرِنَا) رواه أبو داود.

មានន័យថា:(លៀងល្ហាត់សំរាប់ពួកយើង ហើយរូងត្រង់សំរាប់អ្នកផ្សេងពីពួកយើង)។

- ការជីករូងបញ្ចិតមានន័យថា:ការជីករូងមួយសំរាប់សាកសពនៅបាតផ្នូរខាងទិសគីបឡាត់សំរាប់ដាក់សាកសព(លៀងល្ហាត់)(មើលរូបទី22)។




- ការជីករូងត្រង់មានន័យថា: ការជីករូងចំកណ្តាលបាតផ្នូរ(មើលរូបទី23)។




-ស៊ូណាត់ជីកផ្នូរអោយជ្រៅដើម្បីជានាសុវត្ថិភាពដល់សាកសពពីសត្វសាហាវ និងជៀសវាងក្លិនអាសោចចេញមកក្រៅ។ អ្នកដាក់សពបញ្ចូល គប្បីសូត្រថា៖

( بِسْمِ اللهِ وَعَلَى سُنَّةِ رَسُوْلِ اللهِ ) رواه أبو داود

ព្រោះនេះជាទង្វើរបស់រ៉សូលុលឡោះ(ស-ល-វ)។

## អ្នកបញ្ចុះសព

អ្នកដែលគប្បីបញ្ចូលសាកសពក្នុងផ្នូរគឺអ្នកដែលសពបានផ្តែផ្តាំ បន្ទាប់មកគឺសាច់សារលោហិតរបស់សាកសព បើមិនដូច្នេះទេ អ្នកឥស្លាមម្នាក់ណាក៏បានដែរ។

- ជាស៊ុណ្ណះអោយបញ្ចូលសាកសពក្នុងផ្នូរផ្អៀងលើ

ចំហៀងខាងស្តាំបែរសំដៅគីបឡាត់(មើលរូបទី24)




យោងតាមប្រសាសន៍របស់រ៉សូលុលឡោះថា៖

(اَلْكَعْبَةُ قِبْلَتُكُمْ أَحْيًا وَأَمْوَاتاً ) رواه البيهقي .

មានន័យថា: កាក់ហ្ពះគឺជាគីបឡាត់របស់ពួកអ្នក ទាំងអ្នករស់ទាំងអ្នកស្លាប់ៗ

- មិនត្រូវដាក់កល់ក្រោមក្បាលរបស់សាកសពនូវកំណល់អ្វីមួយដូចជាដុំថ្មឬដុំឥដ្ឋ ព្រោះថាគ្មានភស្តុតាងណាមួយបញ្ជាក់ក្នុងរឿងនេះឡើយ ហើយក៏កុំអោយមើលមុខសាកសពដែរលើកលែងសាកសពនោះស្លាប់

ក្នុងសភាពជាអ្នកកាន់តំណម(ក្នុងពេលកំពុងធ្វើហាជ្ជីឬអ៊ុំរ៉ស់)ដូចមានបញ្ជាក់ខាងដើមមកហើយក្រោយមកត្រូវបិតមាត់រូងសាក សព(លៀងល្ហាត់)ដោយដុំថ្មឬបន្ទះក្តាររួចលុបដីវិញ។

-ជាស៊ុណ្ណះក្រោយពីការរៀបចំដាក់សាកសពក្នុងផ្នូរហើយគប្បីពោយដីចូលក្នុងផ្នូរគ្រប់អ្នកដែលបានមកចូលរួមដោយម្នាក់ៗពោយបីដង(ម្តងមួយកំបង់)ព្រោះនេះជាទង្វើរបស់ណាហ្គី[1](មើលរូបទី25)។




[1] មានបញ្ជាក់ក្នុងសៀវភៅអ៊ិបនូម៉ាជះ។

-ជាការល្អអោយពូនផ្នូរកំពស់ខ្ពស់ពីដីចំនួនមួយចំអាមដើម្បីអោយគេដឹងថានេះជាផ្នូរជៀសវាងការមាក់ងាយផ្សេងៗ។ ដោយពូនជាពំនូកប្រហែលនឹងបូកសត្វអូដ្ឋ (មើលរូបទី26)។




ព្រោះបើធ្វើដូច្នេះវាដូចផ្នូរណាហ្គីដែរ(**1**)។

ក្រោយមកទៀតគេត្រូវដាក់គ្រួសនៅលើផ្នូរដូចគេបានធ្វើនៅលើផ្នូររបស់ណាហ្គី(2) ដើម្បីអោយស្គាល់ថានោះជាផ្នូរនិងជៀសវាងការមាក់ងាយ។ក្រោយមកដាក់ដុំថ្មនៅលើផ្នូរផ្នែកខាងក្បាលរបស់សាកសពដើម្បីជាសញ្ញាសំគាល់

[1] មានបញ្ជាក់ក្នុងសៀវភៅសហេសពូខរី។

[2] មានបញ្ជាក់ក្នុងសៀវភៅអាពូដាវូឌ។

ដូចដែលរ៉ស៊ូលុលឡោះបានដាក់នៅលើផ្នូររបស់អ៊ូស្មាន កូនរបស់ម៉ាសអ៊ូន(រ-ឌ-ហ)[1]។

- បំរាមដាច់ខាតមិនអោយសង់ជារូបរាងសំណង់ ឆ្លាក់ជាអក្សរ អង្គុយ ដើរជាន់ឬផ្អែកលើផ្នូរទេ ព្រោះថាអំពើទាំងអស់នេះត្រូវបានណាហ្គី(ស-ល-វ )ហាមឃាត់ដាច់ខាត[2]។

- ជាប្រការមិនគប្បីក្នុងការបញ្ចុះសាកសពពីរឬច្រើនក្នុងផ្នូរតែមួយ លើកលែងតែក្នុងករណីចាំបាច់ ដូចជាសាកសពច្រើន ហើយអ្នករៀបចំកប់សាកសពតិច ដូចជាគេបានធ្វើចំពោះអ្នកស្លាប់ក្នុងសង្គ្រាមនៅអ៊ូហ៊ុដ។
បើក្នុងករណីចាំបាច់ត្រូវដាក់សាកសពពីរក្នុងផ្នូរតែមួយនោះត្រូវដាក់អោយបានឃ្លាតពីគ្នាដោយមានដីបាំងជារនាំង ។

[1] មានបញ្ជាក់ក្នុងសៀវភៅអាពូដាវូឌ។

[2] មានបញ្ជាក់ក្នុងសៀវភៅសហេសមូស្លីម។

- ជាការស៊ូណាត់ត្រូវរៀបចំម្ហូបអាហារអោយក្រុមគ្រួសារសាកសពដោយសារតែពួកគេកំពុងរវល់នឹងបញ្ហាសាកសព ។ ដូចប្រសាសន៍របស់រ៉សូលុលឡោះ(ស-ល-វ) នៅពេលដែលយ៉ាក់ហ្វើរកូនរបស់អាហ្ពីតាឡឹប(រ-ឌ-ហ)បានស្លាប់ថា៖

( أَطْعِمُوْا آلَ جَعْفَرٍ طَعَاماً فَقَدْ أَتَاهُمْ مَا يُشْغِلُهُمْ ) رواه أبو داود

មានន័យថា: ចូរអ្នកទាំងអស់គ្នារៀបចំម្ហូបអាហារសំរាប់ក្រុមគ្រួសាររបស់យ៉ាក់ហ្វើរដោយពួកគេកំពុងតែជួបប្រទះនឹងការរវល់(ការស្លាប់)។

-ជាប្រការមិនគប្បីសោះឡើយចំពោះក្រុមគ្រួសារសាកសព រៀបចំម្ហូបអាហារសំរាប់អ្នកដែលមកចូលរួម ដោយយោងតាមសំដីសាហាហ្ពាត់របស់រ៉សូលុលឡោះបានពោលថា៖

(كُنَّا نَعُدُّ صُنْعَ الطَّعَامِ وَالاجْتِمَاعِ لِأَهْلِ الْمَيِّتِ مِنَ النِّيَاحَةِ ) رواه أحمد

មានន័យថា: យើងតែងតែចាត់ទុកថាការធ្វើម្ហូបអាហារ

និងការប្រមូលផ្តុំគ្នានៅផ្ទះសាកសពជានីយ៉ាហះ។

- ជាស៊ុណ្ណះសំរាប់បុរសគេទអោយចូលទៅមើលផ្នូរ ដើម្បីសុំឌូអាអោយបណ្តាសាកសពនិងគិតពិចារណា សំរាប់អនាគតរបស់ខ្លួន(មើលរូបទី26)




ដូចរ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា៖

( كُنْتُ نَهَيْتُكُمْ عَنْ زِيَارَةِ الْقُبُوْرِ ، فَزُوْرُوْهَا ، فَإِنَّهَا تُذَكِّرُكُمُ الآخِرَةَ ) رواه مسلم

មានន័យថា៖ (ខ្ញុំតែងតែហាមឃាត់អ្នកទាំងអស់គ្នាក្នុងការចូលទៅមើលផ្នូរ(ឥឡូវនេះ)ចូរអ្នកចូលទៅមើលផ្នូរចុះ ប្រាកដណាស់វាអាចជំរុញពួកអ្នកទាំងអស់គ្នាអោយ

នឹកគិតដល់ថ្ងៃបរលោក)។

រីឯស្ត្រីភេទវិញត្រូវបានច្បាប់ហាមឃាត់ក្នុងការចូលទៅមើលទីផ្នូរដោយរ៉សូលុលឡោះ(ស-ល-វ)បានមានប្រសាសន៍ថា៖

(لُعِنَ زَائِرَاتُ الْقُبُوْرِ) رواه أهل السنن.

មានន័យថា:គេបានដាក់បណ្តាសារដល់អ្នកដែលចូលទៅមើលផ្នូរជាស្ត្រីភេទ។

ដោយសារស្ត្រីភេទមានភាពទន់ជ្រាយក្នុងការអត់ធ្មត់អាចបណ្តាលអោយពួកគេសំដែងចេញនូវប្រការបំរាមផ្សេងៗដូចជាទួញសោក ខ្ទះខ្ទាចមុខមាត់និងទង្វើផ្សេងៗជាដើម ដែលជាហេតុបង្ករអោយមានចលាចលនៅកន្លែងដែលសំរាប់តែគិតដល់ថ្ងៃបរលោក។ប៉ុន្តែការដើរក្បែរផ្នូរដោយគ្មានបំណងចូលទៅក្នុងមើលផ្នូរ ពុំមានបញ្ហាអ្វីឡើយនិងអាចអោយសឡាមបាន។

-ចំពោះអ្នកដែលចូលទៅមើលផ្នូរគេប្បីសូត្រដូចខាងក្រោម

اَلسَّلاَمُ عَلَيْكُمْ دَارَقَوْمٍ مُؤْمِنِيْنَ ، وَإِنَّا إِنْ شَاءَ اللهُ بِكُمْ لاَحِقُوْنَ

ព្រោះការសូត្រនេះជាការបង្គាប់ប្រើរបស់រ៉សូលុលឡោះ (ស-ល-វ )។ អ្នកមូស្លីមត្រូវមានការប្រុងប្រយ័ត្នខ្ពស់ និង ជៀសវាងអំពីការលើកតំកើងផ្នូរឬចាត់ទុកផ្នូរជាកន្លែង ផ្តល់លាភសក្ការៈនិងការស្ទាបអង្អែលផ្នូរជាដើម ព្រោះ ទង្វើទាំងនេះអាចនាំអោយអ្នកនោះធ្លាក់ចូលក្នុងផ្លូវពហុ ទេពនិយម។

- បំពោះការលើកតំកើងផ្នូរមានន័យថាចាត់ទុកផ្នូរ កន្លែងផ្តល់ផលល្អឬបញ្ចៀសផលអាក្រក់ ។

## ការជួយរំលែកទុក្ខ

- ជាស៊ុណ្ណះអោយជួយរំលែកទុក្ខក្រុមគ្រួសារអ្នកស្លាប់ ដោយពោលថា:

(إِنَّ لِلَّهِ مَا أَخَذَ،وَلَهُ مَا أَعْطَى،وَكُلُّ شَيْءٍ عِنْدَهُ بِأَجَلٍ مُسَمًّى،فَاصْبِرْ وَاحْتَسِبْ )

متفق عليه

មានន័យថា:(ជាការពិតណាស់របស់អល់ឡោះគឺអ្វីៗដែលទ្រង់យកនិងអ្វីៗដែលទ្រង់ផ្តល់ ហើយអ្វីៗដែលមាននៅនឹងទ្រង់ គឺមានពេលវេលាកំណត់ជាក់លាក់។ ដូច្នេះសូមអ្នកអត់ធ្មត់និងប្រាថ្នាផលបុណ្យពីអុលឡោះ)។ ព្រោះនេះជាការបញ្ជាក់អំពីរ៉ស៊ូលុលឡោះ(ស-ល-វ)។ ប្រសិនបើនរណាសូត្រថា: عَظَّمَ اللهُ أَجْرَكَ មានន័យថា:សូមអល់ឡោះផ្តល់ផលបុណ្យដ៏ធំធេងដល់អ្នក ឬសូត្រថា: (أَحْسَنَ اللهُ عَزَاكَ) ក៏បានមិនជាអ្វីដែរ។ហើយឃ្លានេះជាពាក្យសុំឌូអាដែលមានន័យថា: សូមអល់ឡោះបង្វែរការទុក្ខព្រួយរបស់អ្នកទៅជាការល្អប្រសើរវិញ។

- ការយំសោកបន្តិចបន្តួច ដោយសារការសោកស្តាយចំពោះសាកសពត្រូវបានច្បាប់អនុញ្ញាតពីព្រោះណាប៊ីយើងស្រក់ទឹកភ្នែកនៅពេលដែលកូនរបស់គាត់អ៊ីបរ៉ហ៊ីមបានស្លាប់ [1]។ ប៉ុន្តែត្រូវជៀសវាងការស្រែកទ្រហោយំ

[1] មានបញ្ជាក់ក្នុងសៀវភៅសហេសទាំងពីរ។

ដោយបញ្ចេញសំលេងខ្លាំងៗឬការត្អូញត្អែររៀបរាប់អំពីទង្វើកល្អរបស់សាកសពកាលនៅរស់។

- ច្បាប់អនុញ្ញាតអោយគ្រួសារសាកសពកាន់ទុក្ខចំពោះសាកសពដោយមានពេលកំណត់ដូចជាការផ្អាកការងារជួញដូររបស់គេ ការចេញទៅកំសាន្ត ឬការងារផ្សេងៗក្នុងន័យកាន់ទុក្ខចំពោះសាកសព។

ពេលវេលាដែលគេកំណត់ក្នុងការកាន់ទុក្ខនោះរយៈពេលបីថ្ងៃប៉ុណ្ណោះ លើកលែងតែប្រពន្ធចំពោះប្ដីរបស់នាងគឺចាំបាច់សំរាប់នាងត្រូវចាំរយៈពេលបួនខែដប់ថ្ងៃប្រសិនបើនាងមិនមានផ្ទៃពោះទេនោះ។ចំណែកឯអ្នកមានផ្ទៃពោះត្រូវរង់ចាំរហូតដល់នាងសំរាលកូនរួច។

-ជាទង្វើដែលត្រូវគេហាមឃាត់ដូចជាការត្អូញត្អែររៀបរាប់ពីគុណសម្បត្តិរបស់សាកសពនិងការទួញសោកហួសប្រមាណ។

ហើយជាប្រការបំរាមផងដែរចំពោះអ្នកទ្រហោយំទួញ

សោកដោយហែកខោអាវនិងខ្វាំមុខមាត់រឺក៏ហោចសក់និងធ្វើប្រការផ្សេងៗទៀតប្រហាក់ប្រហែលនេះ។ ដោយមានភស្តុតាងពីរ៉សូលុលឡោះ(ស-ល-វ )បានមានប្រសាសន៍ថា៖

(لَيْسَ مِنَّا مَنْ لَطَمَ الْخُدُوْدَ ، وَشَقَّ الْجُيُوْبَ ، وَدَعَا بِدَعْوَى الْجَاهِلِيَّةِ )

متفق عليه .

មានន័យថា: (ពុំមែនស្ថិតក្នុងក្រុមរបស់យើងទេជនណាដែលខ្វាំមុខមាត់ ហែកសំលៀកបំពាក់ ហើយនិងអ្នកពោលពាក្យឬកាន់ អត្តចរិកដូចក្រុមមនុ ដែលល្ងង់ខ្លៅ)។

យើងខ្ញុំសូមបួងសួងដល់អល់ឡោះជាម្ចាស់សូមទ្រង់មេត្តាប្រទានដល់ពួកយើងខ្ញុំនិងមិត្តអ្នកអានទាំងឡាយនូវការចង្អុរបង្ហាញទៅរកផ្លូវត្រូវនិងភាពសុច្ចរិតទាំងលោកិយនិងបរលោក។